# លោកុប្បត្តិ

១ ១ កាលដើមដំបូងឡើយ ព្រះបានបង្កើតផ្ទៃមេឃនឹង
ផែនដី ។
២ ឯផែនដីបានខូច ហើយនៅទទេ មានសុទ្ធតែ
ងងឹតនៅគ្របលើជំរៅទឹក ហើយព្រះវិញ្ញាណនៃព្រះក៏រេរា
នៅពីលើទឹក ៣ នោះព្រះទ្រង់មានបន្ទូលថា ចូរឲ្យមានពន្លឺ
ឡើង ដូច្នេះពន្លឺក៏មានឡើង ៤ ព្រះទ្រង់ឃើញពន្លឺនោះក៏
យល់ថាជាល្អហើយ រួចទ្រង់ញែកពន្លឺពីងងឹតចេញ ៥ ទ្រង់
ហៅពន្លឺថាជាថ្ងៃ ហើយហៅងងឹតថាជាយប់ នោះក៏មាន
ល្ងាចមានព្រឹកឡើង ជាថ្ងៃទី១ ។
៦ បន្ទាប់មក ព្រះទ្រង់មានបន្ទូលថា ចូរឲ្យមានប្រឡោះ
នៅកណ្តាលទឹក ដើម្បីញែកទឹកចេញពីគ្នា ៧ ទ្រង់ក៏ធ្វើ
ប្រឡោះនោះ ទាំងញែកទឹកដែលនៅក្រោមប្រឡោះចេញ
ពីទឹកដែលនៅលើប្រឡោះ ក៏មានដូច្នោះ ៨ រួចព្រះទ្រង់
ហៅប្រឡោះនោះថាជាមេឃ នោះក៏មានល្ងាចមានព្រឹក
ឡើង ជាថ្ងៃទី២ ។
៩ បន្ទាប់មក ព្រះទ្រង់មានបន្ទូលថា ចូរឲ្យទឹកនៅ
ក្រោមមេឃប្រមូលគ្នានៅកន្លែងតែ១ ហើយឲ្យមានទីគោក
ផុសលេចឡើង នោះក៏មានដូច្នោះ ១០ ទ្រង់ហៅទីគោក
នោះថាជាដី ហើយទីទឹកដែលប្រមូលគ្នានោះថាជាសមុទ្រ
នោះទ្រង់ក៏ឃើញថាល្អ ១១ រួចព្រះទ្រង់មានបន្ទូលថា ចូរ
ឲ្យដីដុះតិណជាតិឡើង គឺជាពួកស្មៅដែលមានគ្រាប់ នឹង
រុក្ខជាតិមានផ្លែតាមពូជ ដែលមានគ្រាប់ក្នុងផ្លែនោះនៅផែន
ដី នោះក៏មានដូច្នោះ ១២ ដីក៏ដុះតិណជាតិទាំងឡាយឡើង
គឺជាពួកស្មៅដែលមានគ្រាប់តាមពូជ នឹងរុក្ខជាតិមានផ្លែ
តាមពូជដែរ ហើយមានគ្រាប់នៅក្នុងផ្លែនោះឯង រួចទ្រង់
ឃើញថាល្អ ១៣ នោះក៏មានល្ងាចមានព្រឹកឡើង ជាថ្ងៃ
ទី៣ ។
១៤ បន្ទាប់មក ព្រះទ្រង់មានបន្ទូលថា ចូរឲ្យមានតួ
ពន្លឺនៅនាផ្ទៃមេឃ ដើម្បីនឹងញែកថ្ងៃចេញពីយប់ សំរាប់
ទុកជាទីសំគាល់នៃរដូវ ថ្ងៃ នឹងឆ្នាំ ១៥ ហើយសំរាប់ជា
ពន្លឺនៅផ្ទៃមេឃ ដើម្បីបំភ្លឺមកផែនដី នោះក៏មានដូច្នោះ
១៦ ទ្រង់ធ្វើពន្លឺធំជា២តួ ១ដែលធំជាង នោះសំរាប់បំភ្លឺ
ក្នុងពេលថ្ងៃ ហើយ១ដែលតូចជាងសំរាប់បំភ្លឺក្នុងពេលយប់
ក៏ធ្វើឲ្យមានផ្កាយទាំងប៉ុន្មានដែរ ១៧ ទ្រង់ដាក់តួពន្លឺទាំង
នោះនៅផ្ទៃមេឃ សំរាប់នឹងបំភ្លឺមកលើផែនដី ១៨ ឲ្យមាន
អំណាចនៅពេលថ្ងៃនឹងពេលយប់ ហើយឲ្យញែកពន្លឺ
ចេញពីងងឹត រួចទ្រង់ឃើញថាជាល្អ ១៩ នោះក៏មានល្ងាច
មានព្រឹកឡើង ជាថ្ងៃទី៤ ។
២០ បន្ទាប់មក ព្រះទ្រង់មានបន្ទូលថា ចូរឲ្យមានមច្ឆ
ជាតិរវើកនៅក្នុងទឹកជាបរិបូរ នឹងបក្សីជាតិហើរលើដីនៅ
នាអាកាស ២១ ទ្រង់ក៏បង្កើតអស់ទាំងសត្វសំបើមៗ នឹង
ជីវិតទាំងឡាយដែលកំរើក ដែលកើតមានរវីនរវ័ណ្ឌនៅ
ក្នុងទឹកតាមពូជ ហើយអស់ទាំងសត្វស្លាបតាមពូជដែរ រួច
ទ្រង់ឃើញថាល្អ ២២ ទ្រង់ក៏ប្រទានពរដល់សត្វទាំងឡាយ
នោះ ហើយមានបន្ទូលថា ចូរបង្កើតកូនឲ្យចំរើនជាច្រើន
ឡើង ឲ្យមានពេញពាសនៅក្នុងទឹកសមុទ្រ ហើយឲ្យសត្វ
ស្លាបចំរើនឡើងនៅផែនដីដែរ ២៣ នោះក៏មានល្ងាច មាន
ព្រឹកឡើង ជាថ្ងៃទី៥ ។
២៤ បន្ទាប់មក ព្រះទ្រង់មានបន្ទូលថា ចូរឲ្យមាន
ចតុប្បាទជាតិកើតមកនៅដីគោកតាមពូជ គឺជាសត្វស្រុក

សត្វលូនវារ នឹងសត្វព្រៃនៅផែនដីតាមពូជ នោះក៏មាន
ដូច្នោះ ២៥ទ្រង់ក៏ធ្វើសត្វព្រៃនៅផែនដីតាមពូជ សត្វស្រុក
តាមពូជ ហើយគ្រប់ទាំងសត្វដែលលូនវារនៅដីគោកតាម
ពូជដែរ រួចទ្រង់ឃើញថាល្អ ២៦ទ្រង់ក៏មានបន្ទូលថា ចូរ
យើងធ្វើមនុស្សឲ្យដូចជារូបយើង ឲ្យមានភាពដូចយើង
ហើយឲ្យមានអំណាចលើត្រីសមុទ្រ សត្វហើរលើអាកាស
នឹងសត្វជើង៤ដែលនៅលើផែនដីទាំងមូល ព្រមទាំងសត្វ
លូនវារដែលវារនៅផែនដីផង ២៧ទ្រង់ក៏បង្កើតមនុស្សឲ្យ
ដូចរូបអង្គទ្រង់ គឺបានបង្កើតគេឲ្យចំនឹងរូបអង្គទ្រង់នោះឯង
ក៏បង្កើតគេឡើងជាប្រុសជាស្រី ២៨ទ្រង់ប្រទានពរដល់
គេ ហើយមានបន្ទូលថា ចូរបង្កើតកូនឲ្យចំរើនជាច្រើន
ឡើង ឲ្យមានពេញពាសលើផែនដីចុះ ត្រូវបង្ក្រាបផែនដី
ហើយមានអំណាចលើត្រីសមុទ្រ សត្វហើរលើអាកាស
នឹងជីវិតផងទាំងឡាយដែលកំរើកនៅផែនដីផង ២៩ទ្រង់
មានបន្ទូលថា មើល អញឲ្យគ្រប់ទាំងតិណជាតិមានគ្រាប់
ពូជដែលដុះនៅផែនដី នឹងគ្រប់ទាំងរុក្ខជាតិទាំងឡាយដែល
កើតផ្លែមានគ្រាប់ពូជ ទុកជាអាហារដល់ឯង ៣០ហើយ
អញក៏ឲ្យគ្រប់ទាំងតិណជាតិខៀវ ទុកជាអាហារដល់អស់
ទាំងសត្វនៅលើដី សត្វហើរលើអាកាស នឹងសត្វលូនវារ
នៅដី ដែលមានជីវិតទាំងប៉ុន្មានដែរ នោះក៏មានដូច្នោះ
៣១រួចព្រះទ្រង់ទតគ្រប់ទាំងរបស់ដែលទ្រង់បានធ្វើនោះ ក៏
ឃើញថា ទាំងអស់ជាការល្អប្រពៃ នោះក៏មានល្ងាចមាន
ព្រឹកឡើង ជាថ្ងៃទី៦ ។

២ ១ដូច្នេះផ្ទៃមេឃនឹងផែនដីក៏បានរួចជាស្រេច ព្រម
ទាំងរបស់សព្វសារពើផង ២លុះដល់ថ្ងៃទី៧ ការដែល
ព្រះទ្រង់ធ្វើ នោះបានហើយជាស្រេច ទ្រង់ក៏ឈប់ផ្អាក
សំរាកនៅថ្ងៃទី៧នោះ ពីគ្រប់ទាំងការដែលទ្រង់ធ្វើ ៣ព្រះ
ទ្រង់ក៏ប្រទានពរដល់ថ្ងៃទី៧នោះ ព្រមទាំងញែកទុកជាថ្ងៃ
បរិសុទ្ធ ពីព្រោះនៅថ្ងៃនោះ ទ្រង់បានឈប់សំរាកពីគ្រប់
ទាំងការដែលទ្រង់បានបង្កើតបានធ្វើ ។

៤នេះហើយជាដើមកំណើតនៃផ្ទៃមេឃនឹងផែនដីក្នុង
កាលដែលបានកើតមក គឺនៅវេលាដែលព្រះយេហូវ៉ាដ៏ជា
ព្រះទ្រង់បានធ្វើផែនដី នឹងផ្ទៃមេឃនោះឯង ៥រីឯនៅផែនដី
នោះមិនទាន់មានអ្វីដុះនៅឡើយទេ ក៏មិនទាន់មានតិណ
ជាតិណានៅវាលដែរ ពីព្រោះព្រះយេហូវ៉ាដ៏ជាព្រះទ្រង់មិន
បានបង្អុរភ្លៀងមកលើផែនដីសោះ ហើយក៏គ្មានមនុស្ស
ណានឹងភ្ជួររាស់ដីផង ៦គ្រាន់តែមានចំហាយឡើងពីដីមក
ស្រោចស្រប់គ្រប់លើផែនដីប៉ុណ្ណោះ ៧ព្រះយេហូវ៉ាដ៏ជា
ព្រះទ្រង់យកធូលីដីមកសូនធ្វើជាមនុស្ស ទ្រង់ផ្លុំខ្យល់
ដង្ហើមជីវិតបញ្ចូលទៅក្នុងរន្ធច្រមុះ នោះក៏ត្រឡប់ជាមាន
ព្រលឹងរស់ឡើង ។

៨រួចព្រះយេហូវ៉ាដ៏ជាព្រះទ្រង់ធ្វើសួនច្បារ១នៅស្រុក
អេដែនទិសខាងកើត ក៏ដាក់មនុស្សដែលទ្រង់បានសូនធ្វើ
ឲ្យនៅទីនោះ ៩ព្រះយេហូវ៉ាដ៏ជាព្រះទ្រង់ក៏ធ្វើឲ្យដីដុះគ្រប់
អស់ទាំងដើមឈើដែលគួរពិចពិលរមិលមើល ហើយ
សំរាប់ជាអាហារផង ក៏ដាំដើមជីវិតនឹងដើមសំរាប់ដឹងខុស
ត្រូវ នៅកណ្តាលសួនច្បារនោះដែរ ១០មានទន្លេ១ហូរ
ចេញពីស្រុកអេដែនមកស្រោចសួនច្បារនោះ រួចហូរបែក
ពីនោះទៅជា៤មុខ ១១ទី១ឈ្មោះពិសុន គឺជាទន្លេដែល
ហូរព័ទ្ធស្រុកហាវីឡាដែលមានមាស ១២មាសដែលមក
ពីស្រុកនោះជាមាសយ៉ាងល្អ ក៏មានទាំងប្ដេលាម នឹងត្បូង
អូនីក្សផង ១៣ទី២ឈ្មោះគីហុន គឺជាទន្លេដែលហូរព័ទ្ធ
ស្រុកគូស ១៤ទី៣ឈ្មោះហីដេកែល គឺជាទន្លេដែលហូរ
ធាក់ទៅខាងកើតស្រុកអាសស៊ើរ ហើយទន្លេទី៤ឈ្មោះ
អ៊ើប្រាត ១៥ព្រះយេហូវ៉ាដ៏ជាព្រះទ្រង់យកអ័ដាមទៅ
ដាក់នៅក្នុងសួនច្បារអេដែន ឲ្យគាត់ធ្វើការហើយថែរក្សា
១៦ព្រះយេហូវ៉ាដ៏ជាព្រះទ្រង់បង្គាប់ទៅអ័ដាមថា ឯងនឹង

ស៊ីផ្លែឈើទាំងអស់ក្នុងសួនច្បារនេះបានតាមចិត្ត ១៧តែឯ
ត្រង់ដើមដឹងខុសត្រូវ នោះមិនត្រូវឲ្យឯងស៊ីផលឡើយ
ដ្បិតនៅថ្ងៃណាដែលឯងស៊ី នោះនឹងត្រូវស្លាប់ជាមិន
ខាន ។

១៨ព្រះយេហូវ៉ាដ៏ជាព្រះទ្រង់មានបន្ទូលថា ដែល
មនុស្សនេះនៅតែម្នាក់ឯង នោះមិនស្រួលទេ អញនឹងធ្វើ
ឲ្យមានម្នាក់ជាជំនួយសំរាប់ជួយវា ១៩ព្រះយេហូវ៉ាដ៏ជា
ព្រះទ្រង់បានយកដីមកសូនធ្វើគ្រប់ទាំងសត្វជើង៤ និង
សត្វហើរទាំងប៉ុន្មាន រួចក៏នាំមកឯអ័ដាម ដើម្បីឲ្យដឹងជា
គាត់នឹងហៅយ៉ាងដូចម្តេច ឯឈ្មោះណាដែលអ័ដាមបាន
ដាក់ឲ្យដល់ជីវិតផងទាំងឡាយ នោះបានសំរេចជាឈ្មោះ
របស់សត្វនោះឯង ២០អ័ដាមដាក់ឈ្មោះឲ្យដល់គ្រប់ទាំង
សត្វស្រុក សត្វព្រៃ នឹងសត្វហើរលើអាកាសទាំងប៉ុន្មានជា
ស្រេច តែមិនឃើញមានជំនួយណាសំរាប់ឲ្យជួយគាត់
សោះ ២១នោះព្រះយេហូវ៉ាដ៏ជាព្រះទ្រង់ធ្វើឲ្យអ័ដាមដេក
លក់ស៊ប់ទៅ រួចទ្រង់យកឆ្អឹងជំនីរគាត់១ ហើយភ្ជិតសាច់
ទៅវិញ ២២រីឯឆ្អឹងដែលព្រះយេហូវ៉ាដ៏ជាព្រះបានយកពី
អ័ដាមមក នោះទ្រង់ដបឲ្យកើតឡើងជាមនុស្សស្រី ក៏នាំ
ទៅឯអ័ដាម ២៣អ័ដាមក៏ថា នេះហើយជាឆ្អឹងពីឆ្អឹងអញ
ជាសាច់ពីសាច់អញ នឹងត្រូវហៅថា «ស្ត្រី» ពីព្រោះបាន
យកចេញពីបុរសមក ២៤ដោយហេតុនោះ បានជាមនុស្ស
ប្រុសនឹងលាចេញពីឪពុកម្តាយខ្លួន ទៅនៅជាប់នឹងប្រពន្ធ
វិញ ហើយអ្នកទាំង២នោះនឹងត្រឡប់ជាសាច់តែ១សុទ្ធ
២៥រីឯអ័ដាមនឹងប្រពន្ធគាត់ក៏នៅជាអាក្រាតទទេ ឥតមាន
សេចក្តីអៀនខ្មាសឡើយ ។

៣ ១ឯពស់ជាសត្វចេះឧបាយកលលើសជាងអស់ទាំង
សត្វព្រៃ ដែលព្រះយេហូវ៉ាដ៏ជាព្រះទ្រង់បានបង្កើត វា
និយាយទៅកាន់ស្ត្រីថា តើព្រះមានបន្ទូលហាមមិនឲ្យអ្នក
បរិភោគផ្លែឈើណានៅក្នុងសួនច្បារមែនឬ ២ស្ត្រីឆ្លើយ
តបថា យើងបរិភោគអស់ទាំងផ្លែឈើនៅក្នុងសួនច្បារ
បាន ៣តែត្រង់ដើមឈើ១ដែលនៅកណ្តាលសួនច្បារនោះ
ព្រះទ្រង់មានបន្ទូលថា កុំឲ្យបរិភោគផ្លែនោះឡើយ ថែម
ទាំងកុំឲ្យពាល់ប៉ះផង ក្រែងលោស្លាប់ ៤រួចពស់ក៏និយាយ
ទៅស្ត្រីថា អ្នកមិនស្លាប់ជាពិតមែនទេ ៥ដ្បិតព្រះទ្រង់ជ្រាប
ថា នៅថ្ងៃណាដែលអ្នកបរិភោគ នោះភ្នែកអ្នកនឹងបាន
ភ្លឺឡើង ហើយអ្នកនឹងបានដូចជាព្រះដែរ ព្រមទាំងដឹង
ការខុសត្រូវផង ៦កាលស្ត្រីបានឃើញថា ផ្លែឈើនោះ
បរិភោគបាន ក៏ជាទីគាប់ដល់ភ្នែក ហើយជាដើមដែល
ល្មមគួរនឹងចង់បាន ដើម្បីឲ្យបានប្រាជ្ញា នោះនាងក៏យក
ផ្លែមកបរិភោគ ព្រមទាំងចែកឲ្យដល់ប្តីដែរ គាត់ក៏បរិភោគ
តាម ៧នោះស្រាប់តែភ្នែករបស់អ្នកទាំង២បានភ្លឺឡើង
ហើយគេដឹងថាខ្លួននៅជាអាក្រាត ក៏យកស្លឹកល្វាមកក្លាស់
ធ្វើជាប្រដាប់បាំង ៨រួចមកបានឮសំឡេងព្រះយេហូវ៉ាដ៏ជា
ព្រះ ដែលទ្រង់យាងក្នុងសួនច្បារនៅពេលថ្ងៃល្ហើយ នោះ
អ័ដាមនឹងប្រពន្ធគាត់ ក៏ពួននឹងព្រះយេហូវ៉ាដ៏ជាព្រះនៅ
កណ្តាលដើមឈើក្នុងសួនច្បារ ។

៩ព្រះយេហូវ៉ាដ៏ជាព្រះទ្រង់ហៅរកអ័ដាមដោយបន្ទូល
ថា ឯងនៅឯណា ១០គាត់ទូលឆ្លើយថា ទូលបង្គំបានឮ
សំឡេងទ្រង់នៅក្នុងសួនច្បារ ក៏រត់ទៅពួន ដោយនឹកភ័យ
ខ្លាច ពីព្រោះនៅខ្លួនទទេ ១១នោះព្រះយេហូវ៉ាដ៏ជាព្រះទ្រង់
មានបន្ទូលសួរថា តើអ្នកណាប្រាប់ឲ្យឯងដឹងថា ឯងនៅ
ខ្លួនទទេដូច្នេះ តើឯងបានស៊ីផ្លែឈើដែលអញហាមមិនឲ្យ
ស៊ីឬអី ១២អ័ដាមទូលទ្រង់ថា ស្ត្រីដែលទ្រង់បានប្រទានឲ្យ
នៅជាមួយនឹងទូលបង្គំ វាឲ្យផ្លែឈើនោះមកទូលបង្គំ ទូល
បង្គំក៏ទទួលទានទៅ ១៣រួចព្រះយេហូវ៉ាដ៏ជាព្រះទ្រង់មាន
បន្ទូលសួរទៅស្ត្រីថា ឯងបានធ្វើអ្វីដូច្នេះ នាងទូលឆ្លើយ
ថា ពស់វាមកល្បួងបញ្ឆោតខ្ញុំម្ចាស់ ហើយខ្ញុំម្ចាស់បាន

ទទួលទាន ¹⁴ រួចព្រះយេហូវ៉ាដ៏ជាព្រះទ្រង់មានបន្ទូលទៅ
ពស់ថា ដោយព្រោះឯងបានធ្វើដូច្នេះ នោះនៅក្នុងអស់ទាំង
ពួកសត្វស្រុក សត្វព្រៃ ឯងជាសត្វត្រូវបណ្តាសាហើយ គឺ
ឯងត្រូវលូនតែនឹងពោះ ហើយត្រូវស៊ីធូលីដីអស់១ជីវិត
១៥ អញនឹងធ្វើឲ្យឯងហើយនឹងស្ត្រី គឺទាំងពូជឯងនឹងពូជ
នាងមានសេចក្តីខ្មាំងនឹងគ្នា ពូជនាងនឹងកិនក្បាលឯង
ហើយឯងនឹងចឹកកែងជើងគេ ១៦ ទ្រង់ក៏មានបន្ទូលទៅ
ស្ត្រីវិញថា អញនឹងចំរើនឲ្យឯងមានសេចក្តីព្រួយលំបាក
ជាច្រើនឡើង ក្នុងវេលាដែលមានផ្ទៃពោះ ឯងនឹងបង្កើត
កូនដោយឈឺចាប់ ចិត្តឯងនឹងប្រាថ្នាខាងឯប្តី ហើយប្តី
នឹងត្រួតត្រាលើឯង ១៧ រួចទ្រង់ក៏មានបន្ទូលទៅអ័ដាមថា
ដោយព្រោះឯងបានស្តាប់តាមប្រពន្ធឯង ហើយស៊ីផ្លែឈើ
នោះ ដែលអញបានហាមមិនឲ្យស៊ីឡើយ នោះដីត្រូវ
បណ្តាសាដោយព្រោះឯង ឯងត្រូវរកស៊ីពីដីដោយនឿយ
ហត់អស់១ជីវិត ១៨ ដីនឹងដុះជាបន្លាហើយនឹងអញ្ចាញឲ្យ
ឯង ឯងត្រូវស៊ីអស់ទាំងតិណជាតិដែលដុះនៅស្រែចំការ
១៩ ឯងនឹងបានអាហារស៊ីដោយការបែកញើស ដរាបដល់
ឯងត្រឡប់ទៅជាដីវិញ ពីព្រោះអញបានយកឯងពីដីមក
ដ្បិតឯងជាធូលីដី ក៏ត្រូវត្រឡប់ទៅជាធូលីដីវិញ ²⁰ អ័ដាម
បានឲ្យឈ្មោះប្រពន្ធគាត់ថា « អេវ៉ា » ពីព្រោះនាងជា
ម្តាយនៃមនុស្សទាំងអស់ ²¹ នោះព្រះយេហូវ៉ាដ៏ជាព្រះ
ទ្រង់ក៏ធ្វើអាវពីស្បែក ឲ្យអ័ដាមនឹងប្រពន្ធគាត់ពាក់បិទបាំង
កាយ ។

²² រួចព្រះយេហូវ៉ាដ៏ជាព្រះទ្រង់មានបន្ទូលថា មើល
មនុស្សបានត្រឡប់ដូចជាយើង១ដែរ ទាំងដឹងខុសត្រូវផង
ឥឡូវខ្លាចក្រែងវាលូកដៃទៅបេះផ្លែជីវិតស៊ីទៀត ហើយ
រស់ជារៀងរាបដរាបទៅ ²³ ដូច្នេះព្រះយេហូវ៉ាដ៏ជាព្រះ
ទ្រង់ក៏បណ្តេញគាត់ពីសួនច្បារអេដែនចេញ ឲ្យទៅភ្ជួររាស់
ដីដែលទ្រង់បានយកមកបង្កើតគាត់នោះវិញ ²⁴ ទ្រង់
បណ្តេញមនុស្សចេញ ហើយដាក់ចេរូប៊ីននៅខាងកើត
សួនច្បារអេដែន នឹងដាវ ដែលជាអណ្តាតភ្លើងវេបរេទៅ
គ្រប់ទិស ដើម្បីនឹងរក្សាផ្លូវទៅឯដើមជីវិត ។